ចំណុចដងស្រង់មួយចំនួនពីសៀវភៅ

# "ម្តាយខ្ញុំ ហ្គូលដា ម៉ែរ"

**My Mother Golda Meir**

និពន្ធដោយ មេណាខឹម ម៉ែរ[1] (កូនប្រុសរបស់ ហ្គូលដា ម៉ែរ[2])

បោះពុម្ភនៅសហរដ្ឋអាមេរិក ឆ្នាំ១៩៨៣

[1] Menahem Meir
[2] Golda Meir

## ជីវិតគ្រួសារ

- រៀបការជាមួយ Morris Meyerson នៅថ្ងៃទី ២៤ ខែធ្នូ ឆ្នាំ១៩១៧។ តែមុនរៀបការ គាត់ដាក់លក្ខខណ្ឌថា ប្តីគាត់ត្រូវនាំគាត់មករស់នៅប៉ាឡេស្ទីន។ មកប៉ាឡេស្ទីនក្នុងឆ្នាំ១៩២១។ មានកូនពីនាក់ កូនប្រុស Menahem Meir (កើតឆ្នាំ១៩២៤) និងកូនស្រី Sarah Meir (កើតឆ្នាំ១៩២៦)។ ឆ្នាំ១៩៣២ ចាប់ផ្តើមរស់នៅបែកគ្នា ដោយ ប្តីរស់នៅម្នាក់ឯងនៅយេរូសាឡឹម ប៉ុន្តែពួកគាត់មិនបានលែងលះគ្នាទេ។ Morris ស្លាប់ក្នុងខែឧសភា ឆ្នាំ១៩៥១។ ការអប់រំ : រៀនចប់សាលាគរុកោសល្យ និងធ្លាប់ធ្វើជាគ្រូបង្រៀន។

## ការអប់រំកូន

- ក្នុងនាមជា សមាជិកសកម្មរបស់ចលនាបង្កើតរដ្ឋអ៊ីស្រាអែល[3] ដែលមានទេពកុសលក្នុងការពន្យល់ហ្គូលដា ម៉ែរ ធ្វើការងារចលនាជាច្រើន និងធ្វើដំណើរជុំវិញពិភពលោកដើម្បីប្រមែប្រមូលជនជាតិជ្វីហ្វឲ្យមករស់នៅទឹកដីប៉ាឡេស្ទីន ការគាំទ្រ និងថវិកាសម្រាប់ចលនានេះ តែគាត់ក៏ជាម្តាយដ៏ល្អ និងមានទំនាក់ទំនងយ៉ាងល្អជាមួយកូនៗ បើទោះជានៅពេលគាត់នៅបរទេសក្តី។ រាល់ពេលព្រឹកមុនទៅធ្វើការ និងមុនចេញទៅបំពេញបេសកកម្មនៅក្រៅប្រទេស គាត់តែងពន្យល់អំពីហេតុផលនៃដំណើរទាំងនោះ ដើម្បីទទួលការឯកភាពពីកូនគាត់ទាំងពីរឲ្យគាត់ចេញទៅដោយពេញចិត្ត។ ទោះគាត់រវល់ប៉ុណ្ណាក៏ដោយពេលនៅក្រៅប្រទេស គាត់ និងកូនៗគាត់តែសរសេរសំបុត្រសួរសុខទុក្ខគ្នា និងសួរនាំពីនេះពីនោះ ពិសេសការសិក្សារបស់កូនៗ និងការអានសៀវភៅរបស់ពួកគេ។
- ទោះពួកគាត់រស់នៅបែកគ្នាក៏ដោយ កូនៗពុំដែលមានអារម្មណ៍ថា ពួកគាត់នៅបែកគ្នាដែរ ដោយសារតែប្តីគាត់តែងតែផ្តល់ភាពកក់ក្តៅឲ្យកូនៗ និងមកស្នាក់នៅជាមួយកូនៗជាប្រចាំនៅចុងសប្តាហ៍ ដើម្បីបង្រៀនពួកគេឲ្យស្គាល់ពីជីវិត និងរៀនស្រឡាញ់សិល្បៈ អក្សរសិល្ប៍ តន្ត្រី និងការអានសៀវភៅ...។ល។
- គោលការណ៍រួមរបស់ពួកគាត់ក្នុងការចិញ្ចឹមកូនៗៈ ឲ្យស្មោះត្រង់ មានអនាម័យ ចេះទទួលខុសត្រូវ និងមានរបៀបរបបក្នុងការរស់នៅ និងផ្តល់គំរូដល់កូនៗអំពីតម្លៃការងារនៃការបំពេញកិច្ចការបានល្អ ជាជាងដើម្បីតែប្រាក់កម្រៃ (ទំព័រ១៦)។

[3] Zionism

## ជីវិតមុនគ្រាបង្កើតរដ្ឋ (មុនខែឧសភា ឆ្នាំ១៩៤៨)

មុនការប្រកាសរដ្ឋអ៊ីស្រាអែល មានជនជាតិជ្វីហ្វជាង**៧សែននាក់** និងកងទ័ពសម្ងាត់ (ព្រោះស្ថិតក្រោមអាណានិគមអង់គ្លេស) ប្រមាណ**១សែន**នាក់ រួមទាំងស្ត្រីផង ដែលទ័ពទទួលការបណ្តុះបណ្តាលត្រឹមត្រូវមានត្រឹមតែ**១ម៉ឺន**នាក់ និងគ្រឿងសព្វាវុធតិចតួចប៉ុណ្ណោះ។ រដ្ឋអារ៉ាប់នៅជិតខាង (**៧ប្រទេស អេហ្ស៊ីប អ៊ីរ៉ាក់ ហ្ស៊កដានី លីបង់** និង**ស៊ីរី** ដោយមានការគាំទ្រទ័ពពី**អារ៉ាប៊ី សាអូឌីត** និង**យេម៉ែន**)ប្រកាសឈ្លានពានយកទឹកដីប៉ាឡេស្ទីននៅពេលអង់គ្លេសដកខ្លួននៅថ្ងៃទី**១៤ ខែឧសភា ឆ្នាំ១៩៤៨** ហើយនៅថ្ងៃនេះដែរ អ៊ីស្រាអែលត្រៀមប្រកាសរដ្ឋឯករាជ្យសម្រាប់ជនជាតិជ្វីហ្វក្នុងទឹកដីប៉ាឡេស្ទីន ដោយស្រេកឃ្លានចង់បានរដ្ឋផ្ទាល់ខ្លួនជាង**២ពាន់ឆ្នាំមកហើយ**។ គ្រានេះសម្ព័ន្ធអារ៉ាប់មានកម្លាំងទ័ពជាង**៤សែននាក់** បន្ថែមលើកងទ័ពដ៏ល្បីល្បាញរបស់ហ្ស៊កដានី ព្រោះបង្វឹកដោយអង់គ្លេសផ្ទាល់ អ៊ីស្រាអែលគ្រានោះគ្មានសង្ឃឹម**៥០-៥០%**ផង ថាឈ្នះសង្គ្រាមនេះ។ តាមការប៉ាន់ប្រមាណ**នៅចុងឆ្នាំ១៩៩៧** អ៊ីស្រាអែលត្រូវការថវិកា**២៥លានដុល្លារ** ដើម្បីទិញសព្វាវុធ និងត្រៀមខ្លួនក្នុងសង្គ្រាមនេះ។ ក្នុងគ្រាជីខ្លីបែបនេះ ហ្គូលដា ម៉ៃរ ធ្វើដំណើរទៅរៃអង្គាសថវិកានៅសហរដ្ឋអាមេរិកនាចុងខែ**មករា ឆ្នាំ១៩៤៨**។ ទំនងដោយសារពាក្យពេចន៍ប្រកបដោយឧត្តមគតិ និងច្បាស់ៗខាងក្រោមនេះហើយ ស្របនឹងចរិតលក្ខណៈ និងទឹកចិត្តរបស់ជនជាតិជ្វីហ្វជុំវិញពិភពលោកចំពោះជាតិសាសន៍ និងទឹកដីរបស់ខ្លួន ពិសេសជាតិជាជាតិសាសន៍ស្គាប់គ្នាបានផងនោះ ហ្គូលដា ម៉ៃរ ត្រឡប់មកអ៊ីស្រាអែលវិញជាមួយនឹងថវិកា**៥០លានដុល្លារ** ដើម្បីត្រៀមធ្វើសង្គ្រាមខាងលើហើយជ័យជំនះនៃសង្គ្រាមទាមទារឯករាជ្យនេះបានទៅលើអ៊ីស្រាអែល។

- "វាជាបទឧក្រិដ្ឋចំពោះ ខ្ញុំ បើខ្ញុំមិនប្រាប់អំពីស្ថានភាពពិតប្រាកដដល់បងប្អូនទេនោះ។ ជាមួយតែ ម្រាមដៃដប់ ស្មារតី និងការលះបង់របស់ពួកយើង មិនអាចទប់ទល់នឹងសង្គ្រាមនេះបានទេ ហើយទីពឹងតែមួយគត់ដែលពួកយើងមាន គឺបងប្អូននេះឯង។ មេសាសនា គាត់មានរដ្ឋអារ៉ាប់ និងថវិការដ្ឋជួយគាត់"។
- "រដ្ឋអេហ្ស៊ីបអាចបោះឆ្នោតអនុម័តកញ្ចប់ថវិកាដើម្បីជួយដល់អ្នកប្រឆាំងនឹងពួកយើង។ រដ្ឋស៊ីរីអាចធ្វើដូចគ្នាដែរ។ ពួកយើងគ្មានរដ្ឋាភិបាលអ្វីទេ ប៉ុន្តែពួកយើងមានជនជាតិជ្វីហ្វរាប់លាននាក់នៅជុំវិញពិភពលោក ហើយដូចគ្នានឹងពួកយើងមានជំនឿទៅលើយុវជន-យុវនារីរបស់យើងនៅប៉ាឡេស្ទីនដែរ ខ្ញុំមានជំនឿចិត្តលើជនជាតិជ្វីហ្វនៅសហរដ្ឋអាមេរិកនេះ។ ខ្ញុំជឿថា ពួកគេនឹងយល់អំពីស្ថានភាពដ៏គ្រោះថ្នាក់របស់ពួកយើង ហើយនឹងធ្វើអ្វីដែលពួកគេត្រូវធ្វើ"។
- "បងប្អូនមិនមែនជាអ្នកសម្រេចចិត្តថាតើយើងត្រូវធ្វើសង្គ្រាមនេះ ឬអត់នោះទេ ដោយគេបានធ្វើសេចក្តីសម្រេចចិត្តនេះរួចហើយ នៅសល់តែរឿងមួយគត់ឲ្យបងប្អូនជាអ្នកសម្រេចចិត្ត គឺថាតើពួកយើងនឹងឈ្នះ ឬពួកយើងនឹងចាញ់ក្នុងសង្គ្រាមនេះ"។

## ជីវិតក្នុងនាមជារដ្ឋមន្ត្រីនៃក្រសួងការងារ (ឆ្នាំ១៩៤៩-១៩៥៦)

- **ជនជាតិអ៊ីស្រាអែល ឬជនជាតិជ្វីហ្វជាជាតិសាសន៍និយាយស្តាប់គ្នាបាន**

**ឧទាហរណ៍ទី១**. ក្នុងឆ្នាំ១៩៤៨ មានជនជាតិជ្វីហ្វជិត**៧សែន**នាក់ ហើយនៅចុងឆ្នាំ១៩៥១ ចំនួនកើន**ទ្វេ**ដង និងមានជនអន្តោប្រវេសន៍ចូលមក**១៣ន់**នាក់ក្នុងមួយថ្ងៃ។ ត្រឹមឆ្នាំ១៩**៥៦** ស្រុបបានជនអន្តោប្រវេសន៍ជាង**៩សែន**នាក់ ដែលភាគច្រើនមានតែ**ខោអាវ១**សម្រាប់ និងទ្រព្យសម្បត្តិដែលអាចយកមកតាមខ្លួនបានប៉ុណ្ណោះ។ អ្នកដែលមក**អាល្លឺម៉ង់ អូទ្រីស និងអ៊ីតាលី** សុទ្ធសឹងទទួល**ការប៉ះទង្គិចផ្លូវកាយ និងចិត្តយ៉ាងធ្ងន់ធ្ងរ** ដោយសង្គ្រាមសម្លាប់បំផុតពូជរបស់ពួកណាហ្ស៊ី អ៊ីត្លែ ចំណែកអ្នកមកពីអាហ្វ្រិក និងមជ្ឈឹមបូព៌ា មាន**ជីវភាពក្រីក្រ គ្មានចំណេះដឹង** និង**ជាល្បាយមនុស្ស** ដែលទាំងអស់នេះត្រូវផ្តល់ទីជម្រកការងារ បង្រៀនភាសាហេប្រឺ និង**ប្រែក្លាយឲ្យទៅជាពលរដ្ឋដែលមានប្រយោជន៍ និងមានជំហររឹងមាំនៃរដ្ឋដ៏ថ្មីស្រឡាង១**។ សរុបទៅ អ៊ីស្រាអែលបានស្រូបយកជនអន្តោប្រវេសន៍មកពី**៧០ប្រទេស** និយាយ**ភាសាជិត៧០**ដែរ ដែលក្រុមនីមួយៗមាន**ទំនាមទំលាប់ និងរបៀបមើលឃើញពិភពលោកខុសៗគ្នា** ដែលត្រូវផ្សារភ្ជាប់បញ្ចូលគ្នាឲ្យទៅជាប្រជាជន ឬជាតិសាសន៍តែមួយ។

**ឧទាហរណ៍ទី២**. គ្រា១បន្ទាប់ពីបង្កើតរដ្ឋថ្មីៗ និងតម្រូវការទីជម្រកសម្រាប់ជនអន្តោប្រវេសន៍កាន់តែខ្លាំងឡើងៗ ពេលចុះសួរសុខទុក្ខបុគ្គលិកក្រសួងការងារ សាងសង់អគារឲ្យជនអន្តោប្រវេសន៍**មេការ**ម្នាក់មកជួបគាត់ ហើយត្អូញត្អែរអំពីការងារ ហើយហ្គូលដា ម៉ែរ តបវិញថា មិនអីទេ ខ្ញុំជឿជាក់ថា លោកអាចធ្វើបាន។ មេការរូបនោះក៏តបវិញថា បញ្ហានៅត្រង់ថា ខ្ញុំមានមនុស្ស **១០**នាក់ធ្វើការជាមួយខ្ញុំ តែខ្ញុំចេះនិយាយភាសាតែ**៦**ប៉ុណ្ណោះ។

**ឧទាហរណ៍ទី៣**. សមិទ្ធផលដ៏ចម្បងក្នុងអាណត្តិជារដ្ឋមន្ត្រីក្រសួងការងារ គឺសាងសង់ផ្លូវជាតិធំមួយខ្សែតភ្ជាប់តំបន់ដាច់ស្រយាល និងក្រីក្រនៃBeeshebaនៅ Negev ស្ថិតនៅប៉ែកខាងត្បូងប្រទេសនឹងភូមិភាគកណ្តាល។ ផ្លូវនេះកសាងដោយកម្មករដែលជាជនជាតិជ្វីហ្វមានដើមកំណើតមកពីរាប់សិបប្រទេស។ ផ្លូវនេះត្រូវបានកសាងដោយការយកចិត្តទុកដាក់ និងក្លាយជាសមិទ្ធផលដ៏ប្រឌិត និងចម្បងមួយ ហើយតាមរយៈផ្លូវនេះ ពួកគេស្គាល់គ្នា និងបានរួមសាមគ្គីគ្នាក្នុងនាមជាជាតិសាសន៍តែមួយ។

- ហ្គូលដា ម៉ែរ យល់ថា មនុស្សដែល**គ្មានផ្ទះសម្បែងសមរម្យ** មិនអាចក្លាយជា**អ្នកធ្វើការងារល្អ អ្នកផ្តល់សេវាកម្មល្អ ឬពលរដ្ឋល្អបាន**ឡើយ ដូច្នេះហើយបានជា ក្នុងគ្រាមួយ គាត់បាននិយាយថា "**អ្វីដែលខ្ញុំពេញ**

**ចិត្តក្នុងពេលនោះគឺថា ភាពជាពលរដ្ឋល្អ និងឥរិយាបទល្អប្រសើរពុំកើតមាន និងពុំអាចកើតមានឡើយ នៅពេលដែល ជាច្រើនឆ្នាំ ប្រជាជនត្រូវបានបង្ខំឲ្យរស់នៅក្នុងតង់**”។

- ក្នុងឆ្នាំ១៩**៥០** ហ្គូលដា ម៉ែរ ធ្វើដំណើរទៅកាន់សហរដ្ឋអាមេរិកម្ដងទៀត ដើម្បីរៃអង្គាសថវិកា ដែលគ្រា នោះអ៊ីស្រាអែលត្រូវការថវិកា**១.៥** កោដិដុល្លារសម្រាប់រយៈពេល**៣ឆ្នាំ** ដែល**៦០០លាន**នឹងត្រូវប្រើសម្រាប់ ការផ្ដល់ជម្រក និងកិច្ចការសាធារណៈ រីឯក្រៅពីនេះប្រើសម្រាប់ការអភិវឌ្ឍផ្នែកឧស្សាហកម្ម និងកសិកម្ម ។ ដើម្បីបានថវិកាដ៏ច្រើនសន្ធឹកសន្ធាប់នេះ គាត់ និងទីប្រឹក្សាគាត់បានដាក់ចេញនូវវិធានការដ៏ថ្មីស្រឡាង និងហ៊ានមួយគឺ **១/៣**នៃថវិកានេះនឹងទទួលបានតាមរយៈ**ការប្រមូលពន្ធដារ**នៅអ៊ីស្រាអែល និងមួយសល់ ប៉ុន្មាន**ចេញសញ្ញាប័ណ្ណអ៊ីស្រាអែល**ឲ្យអ្នកជំនួញជនជាតិជ្វីហ្វនៅពេសពេញពិភពលោក ពិសេសនៅ សហរដ្ឋអាមេរិក**វិនិយោគទិញ**។ ជាមួយនឹងអ្នកជំនាញគ្រប់គ្រាន់ ជម្រើសទាំងនេះបានដំណើរការយ៉ាងល្អ ដូចការគិតមែន។
- ក្នុងឆ្នាំ១៩៥៣ ក្នុងការប្រជុំបក្សមួយ នៅពេលដែលសមាជិករដ្ឋាភិបាលរិះគន់ខ្លាំងៗអំពីការចំណាយដ៏ខ្ជះ ខ្ជាយលើកិច្ចការសាធារណៈផង និងការត្អូញត្អែរអំពីការបន្សាំការរស់នៅ និងតម្រូវការរបស់ពួកគេផង គាត់ បាននិយាយថា៖ “**យើងចាំបាច់ត្រូវចាំឲ្យរត់មាត់ដូច ក.ខ.គ ...ដែរ៖**

*** ថា ព្រំដែនពុំមែនជាព្រំដែនទេ នៅពេលដែលព្រំដែនទាំងនោះជាទីដែលគេបោះបង់ចោល។**

*** ថាយើងអាចពឹងផ្អែកលើព្រំដែនបាន លុះត្រាតែមានប្រជានរស់នៅតាមព្រំដែនទាំងនោះ។**

*** ថាដីនោះជាដីរបស់យើង លុះត្រាដែលយើងប្រើប្រាស់ដីនោះជាប្រយោជន៍យើង។**

*** ថាយើងអាចពឹងផ្អែកលើមនុស្សឲ្យពុះពារគ្រប់ឧបសគ្គទាំងអស់ លុះត្រាដែលពួកគេមានអារម្មណ៍ថា ជាពលរដ្ឋនៃរដ្ឋនេះ ពោលគឺមិនដោយសារតែកាន់អត្តសញ្ញាណប័ណ្ណនោះទេ តែដោយសារពួកគេធ្វើការ នៅទីនេះ កសាងប្រទេសជាតិនេះ និងជីកកាប់គាស់ដីរបស់ប្រទេសនេះ**”។

“Must we repeat the ABCs we know so well: that frontiers are not frontiers when they run through wasteland; that one can only rely on frontiers when people live along them; that the soil is ours only when we work it; and that we can rely on the people to stand up to the harshest tests only when they feel themselves to be citizens of this state—not by virtue of certificates of citizenship but because they work here, build the country and till its soil.”

**សមិទ្ធផលផ្សេងៗទៀត** ក្នុងអាណត្តិជារដ្ឋមន្ត្រីក្រសួងការងារ

មាតុភាព៣ខែដោយទទួលប្រាក់ខែ ផ្ដល់ប្រាក់ឲ្យស្ត្រីដើម្បីលើកទឹកចិត្តឲ្យសម្រាលកូននៅមន្ទីរពេទ្យ ធ្វើការ៤៥ម៉ោង/១អាទិត្យ ប្រាក់សន្តិសុខសង្គម ច្បាប់ការពារកម្មករ និងផលប្រយោជន៍សង្គមផ្សេងៗ ទៀត។

## ជីវិតក្នុងនាមជារដ្ឋមន្ត្រីនៃក្រសួងការបរទេស (ឆ្នាំ១៩៥៦-១៩៦៦)

- Developed good relationship with Asia, Africa, Latin America, Europe
- 1962 – Meet with Mother Queen of Cambodia, Angkor Wat, Apsara, rain-forest along the Mekong.
- US (Six Day War in 1967 as de Gaulle got mad) Vs France (50s get arms as US's relation not good)
- Europe, 50% tax deduction for agricultural and industrial produces.
- Namsang region of North Burma

  ស៊ For years Burma had been practically defenceless against constant harassment along its Chinese border; the similarity to our own situation was striking, and in cooperation with Israel's ministry of agriculture and defense, mother had helped introduced in Burma an oriental version of what had been a viable solution in Israel. Many of our borders were and still are protected a well-trained, permanently resident civilian population made up of people who, when of army age, had received their military training in conjunction with what called kibbutz hakshara, or preparation, and afterward, having become skilful solider-farmers, went to live and work on the cooperative border settlements they also helped to defend.

  Mother suggested to the Burmese that they too adopt this approach. Send Burmese soldiers to one-year stay in Israel and sent Israeli experts to train Burmese families on the borders.

- Once in Nairobi she said, "The world cannot be a place of peace and happiness while there are haves and have-nots".

- In 1960, before the General Assembly of the United Nations on the needs of the emerging nations:

  ស៊ "Much has been said and done about what I call 'first aid' about the sharing of food and the transfer of surplus to the hungry. But I wish to say now that we will never be really free as long as our children have to be fed by others. Our freedom will be complete only when we have learned to bring forth what we need form our own soil. The cry that goes out from the African and Asian continents today is: Share with us not only food, but also your knowledge of how produce it. The most frightening inequality in the world lies now in the gap between those who literally reach for the moon and those who do not know how to reach efficiently into their own soil to produce their daily requirements."

## ជីវិតក្នុងនាមជានាយករដ្ឋមន្ត្រី (ឆ្នាំ១៩៦៩-១៩៧៤)

- ក្នុងខែកក្កដា ឆ្នាំ១៩៧១ នៅចំពោះមុខរដ្ឋសភា ហ្គូលដា ម៉ែរថ្លែងថា៖

"ហួសពីការសង្ស័យ បញ្ហាពីរដែលតម្រូវឲ្យមានការយកចិត្តទុកដាក់ជាពិសេស នោះគឺបញ្ហាផ្ទះសម្បែង និងការអប់រំ។ ច្បាប់ស្តីពីការអប់រំរបស់យើងត្រូវយកទៅអនុវត្តស្មើគ្នាចំពោះគ្រប់កុមារនៅអ៊ីស្រាអែល ប៉ុន្តែមិនអាចនិយាយថា សមធម៌នេះត្រូវបានអនុវត្តជាក់ស្តែងឡើយ។ **យើងមិនអាចអះអាងថា មានភាពស្មើគ្នាទេ រវាងក្មេងពីរនាក់រៀនក្នុងថ្នាក់តែ១និង គ្រូតែ១ ប្រសិនបើក្មេងម្នាក់មកពីផ្ទះដែលមានសមាជិកគ្រួសារ៤នាក់ មាន៣បន្ទប់ មានសៀវភៅអានពេញផ្ទះ និងឪពុកម្តាយ ដែលអាចជួយរៀបចំលំហាត់ ឬការងារគ្រូដាក់ឲ្យធ្វើនៅផ្ទះ ខណៈដែលក្មេងម្នាក់ទៀត មកពីផ្ទះដែលមាន២បន្ទប់ មានសមាជិកគ្រួសារ១០នាក់ ហើយគ្មាននរណាអាចជួយឲ្យក្មេងនោះរីកចម្រើននៅសាលារៀនសោះ។** សូមយើងប្រឈមមុខនឹងបញ្ហានេះ ព្រោះថាពុំមានភាពស្មើគ្នាពីកំណើតរវាងក្មេងទាំងនេះឡើយ..."។

ផ្ទះសម្បែងប្រសើរ ការជួយកុមារបន្ថែមនៅសាលារៀន ការងារប្រសើរ និងការចូលរួមក្នុងជីវិតប្រចាំថ្ងៃនៃប្រទេសជាតិ ដែលតាមទស្សនៈរបស់ហ្គូលដា ម៉ែរ ចំណុចទាំងនេះផ្សារភ្ជាប់គ្នាដូចចង្វាក់ គឺការចូលរួមក្នុងជីវិតប្រចាំថ្ងៃនៃសង្គម ពឹងផ្អែកលើផ្ទះសម្បែងប្រសើរ ការជួយកុមារបន្ថែមនៅសាលារៀន និង/ឬការងារប្រសើរ។

- ហ្គូលដា ម៉ែរ យល់ជាងអ្នកណាទាំងអស់ថា "មនុស្សភាគច្រើនចង់គ្រប់គ្រងជីវិតរបស់ខ្លួន និងកំណត់ជោគវាសនារបស់ខ្លួនដោយខ្លួនឯង"។ ហ្គូលដា ម៉ែរ ក៏ដឹងយ៉ាងច្បាស់អំពីអានុភាពនៃភាពក្រីក្រ ប៉ុន្តែនៅគិតដល់ការអនុវត្ត គាត់គិតដល់ **វិធានការច្បាស់លាស់ ជាក់ស្តែង អាចអនុវត្តទៅបាន និងមានលក្ខណៈរូបិយ និង ជាដំណាក់កាលៗ** នៃអ្វីដែលបានអនុវត្តហើយ និងអ្វីដែលនៅសេសសល់ត្រូវធ្វើបន្ថែម។
- Something was going on in Israel that neither mother nor other people in the government seemed to fully to understand. What's more, there was need for **sound and full information**; the people who suffered from poverty knew where the ache was, but how many such people were there? How many kids actually dropped out of school and at what ages? And why? These and other basic things were not common knowledge, and without more specific information one couldn't really even begin to tackle the problem.

  **Result**: PM's Committee on the Problems of Disadvantaged Children and Youth (**126 experts**) working on volunteer basis. (Define problems and come up with recommendations)

  The army set up a parallel committee of its own (Hebrew, math, geography, history)

អនុវត្តតាមអនុសាសន៍ក្នុងរបាយការណ៍ពីគណៈកម្មាធិការនេះ មជ្ឈមណ្ឌលសហគមន៍ (ផ្តល់វគ្គបណ្តុះបណ្តាល មេរៀនបទពិសោធន៍ល្អៗ និងសកម្មភាពសង្គមសម្រាប់កុមារ និងមនុស្សពេញវ័យ) រីកដូចផ្សិត។

## លក្ខណៈពិសេសនានារបស់ហ្គូលដា ម៉ែរ តាមរយៈសក្ខីកម្មរបស់កូនប្រុសគាត់

- និយាយខ្លី សាមញ្ញ និងចំៗ។
- ចំណុចជោគជ័យ គាត់មានមនុស្សល្អៗនៅជុំវិញគាត់ ហើយគាត់ចេះប្រើមនុស្សចំការងារ និងជំនាញ។
- យកចិត្តទុកដាក់នឹងចង្ក្រានបាយ ហើយកាលនៅជារដ្ឋមន្ត្រីក្រសួងការងារ ពេលទៅពិនិត្យសំណង់សម្រាប់ជនអន្តោប្រវេសន៍ម្តងៗ ចំណុចចាប់អារម្មណ៍ជាងគេគឺចង្រានបាន គឺធ្វើយ៉ាងណា ត្រូវមានផាសុខភាព និងសមស្របសម្រាប់ស្ត្រី ព្រោះជាទីដែលស្ត្រីចំណាយពេលច្រើនជាងគេ រួមផ្សំនឹងកន្លែងលាងចានផង។
- ជីវិតជារដ្ឋមន្ត្រី (ការងារ និងការបរទេស) តែងឲ្យអ្នកទៃ (ទាហាន ស្ត្រី និងកម្មករដើរតាមផ្លូវ) ជិះឡានជាមួយ ហើយនិយាយសំណេះសំណាល ដើម្បីយល់ដឹងអំពីបញ្ហា និងស្គាល់មនុស្ស ដែលអ្នកធំភាគច្រើន មិនដែលធ្វើ។
- ជីវិតជារដ្ឋមន្ត្រី រស់នៅគេហដ្ឋានដែលរដ្ឋផ្តល់ឲ្យនៅថ្ងៃធ្វើការ(ច័ន្ទដល់សុក្រ) និងចុងសប្តាហ៍រស់នៅជាមួយកូនៗ និងចៅៗ នៅគេហដ្ឋានផ្ទាល់ខ្លួន។
- ជីវិតជារដ្ឋមន្ត្រី ជិះឡានស្លាកលេខ ៦០០ តែចូលចិត្តប្រើជីវិតសាមញ្ញ ដូចជាទៅផ្សារ និងបង្ហាញខ្លួននៅទីសាធារណៈ រហូតដល់អ្នកខ្លះសួរថា "តើអ្នកជាបង/ប្អូនរបស់ហ្គូលដា ម៉ែរមែនទេ?"
- ជីវិតជារដ្ឋមន្ត្រី នៅចុងសប្តាហ៍ ពេលកូនៗគាត់រៀបចំកម្មវិធីហូបអាហារជាមួយមិត្តភក្តិខ្លួននៅផ្ទះ គាត់តែចូលរួមនិយាយលេងជាមួយពួកគេ ដូចគាត់ស្ថិតក្នុងវ័យដូចពួកគេដែរ។
- ជីវិតជានាយករដ្ឋមន្ត្រី កូនៗ និងចៅៗទៅទទួលនៅព្រលានយន្តហោះពេលវិលត្រឡប់ពីបេសកកម្មនៅបរទេស ហើយពេលផ្តល់សន្និសីទកាសែតនៅព្រលានយន្តហោះគេតែងភ្ញាក់ផ្អើលដោយឃើញ ចៅៗ (អាយុ៥ទៅ១០ឆ្នាំ)អង្គុយជុំវិញគាត់។
- ជាអ្នកមិនរវីរវល់នឹងសាសនា សៀវភៅឈ្មោះ "ម្តាយខ្ញុំ ហ្គូលដា ម៉ែរ" និពន្ធដោយកូនប្រុសគាត់ផ្ទាល់ ដែលរៀបរាប់អំពីដំណើរការជីវិត និងការងាររបស់ម្តាយគាត់ មាន២៥៤ទំព័រ តែគ្មានទំព័រណាមួយនិយាយអំពីជំនឿសាសនារបស់ហ្គូលណា ម៉ែរឡើយ។ លើកលែងតែក្នុងម្ដុំឆ្នាំ១៩៤៨-៤៩ ក្នុងនាមឯកអគ្គរដ្ឋទូតអ៊ីស្រាអែលនៅរ៉ូស៊ី ដើម្បីបានជួបជនជាតិជ្វីហ្វនៅទីនោះ ហ្គូលដា និងមន្ត្រីរបស់គាត់បានទៅព្រះវិហាររបស់ជនជាតិជ្វីហ្វ (មានការហាមប្រាមតឹងរឹងជនជាតិជ្វីហ្វនៅរ៉ូស៊ីជួបជាមួយជនជាតិអុ៊ីស្រាអែល)។
- ជាអ្នកមិនសូវជាវវីរវល់នឹងសាសនា ក្នុងគ្រាមួយពេលវិលត្រឡប់មកពីការដ្ឋានថ្មល់មួយកន្លែង នៅតាមផ្លូវគាត់ឲ្យបុរសកំណើតយេម៉ែនម្នាក់ជិះជាមួយ ហើយសួរបុរសនោះពីនេះ ពីនោះ តែចម្លើយគាត់មានមួយគឺ "អរគុណព្រះអង្គ"។ បន្ទាប់ពីបុរសនោះចុះពីឡានគាត់ គាត់និយាយថា "ឆ្ងល់ណាស់ថាតើគាត់ដឹងគុណដល់រដ្ឋអុ៊ីស្រាអែល ឬព្រះអង្គដ៏ល្អរបស់គាត់ ចំពោះសិទ្ធិបោះឆ្នោត សិទ្ធិបញ្ចេញមតិ និងសេចក្តីថ្លៃថ្នូរ ដែលប្រពន្ធគាត់ទទួលបាននោះ..."។
- មិនអនុញ្ញាតឲ្យនរណាបោកខោអាវក្នុងខ្លួនឡើយ។

- ពេលយប់ តែងផុងតែ និងកាហ្វេឲ្យអ្នកយាមនៅក្រៅផ្ទះ។
- ដក់បារីជាប្រចាំ។

## កាលបរិច្ឆេទសំខាន់ៗ

- **២៩ វិច្ឆិកា ១៩៤៧** អង្គការសហប្រជាជាតិប្រកាសលទ្ធផលនៃការបោះឆ្នោតគាំទ្រការពុះទឹកដីប៉ាឡេស្ទីនជារដ្ឋពីរ រដ្ឋសម្រាប់ជនជាតិជ្វីហ្វ និងរដ្ឋសម្រាប់ជនជាតិអារ៉ាប់។ ជនជាតិជ្វីហ្វអបអរសប្បាយ ខណៈដែលពួកអារ៉ាប់ចាប់ផ្តើមពុះកំហឹងកាន់តែខ្លាំងឡើង ហើយមិនព្រមទទួលយកសេចក្តីសម្រេចនេះ។
- **១៤ ឧសភា ១៩៤៨** ប្រកាសរដ្ឋឯករាជ្យមួយសម្រាប់ជនជាតិជ្វីហ្វ ហៅរដ្ឋអ៊ីស្រាអែល បន្ទាប់ពីបាត់បង់ទឹកដី ខ្ចាត់ខ្ចាយ និងរស់នៅជុំវិញពិភពលោកដោយគ្មានការការពារ និងអនាថា អស់ជាង២ពាន់ឆ្នាំ។
- **១១ ឧសភា ១៩៤៩** ក្លាយជាសមាជិកអង្គការសហប្រជាជាតិ ដោយសម្លេងបោះឆ្នោតគាំទ្រភាគច្រើន។
- **មិថុនា ១៩៤៩ - កញ្ញា ១៩៥០** ប្រតិបត្តិការ On Wings of Eagles ឬ Magic Carpet ឬ Messiah's Coming ឬ *Kanfei Nesharim* ដឹកជនជាតិជ្វីហ្វកំណើតយីម៉ែនប្រមាណ៤៩ ០០០ នាក់ តាមយន្តហោះ ៣៨០ជើងហោះហើរពីអេដែន[4] នៃប្រទេសយីម៉ែន[5]មករស់នៅអ៊ីស្រាអែល។ ប៉ុន្មានខែក្រោយមកទើបសាធារណជនដឹង។

ជនជាតិអុ ីស្រាអែល និងជ្វីហ្វ យកចិត្តទុកដាក់ និងវិនិយោគខ្លាំងទៅលើកុមារ ឩ

ទី១. ហ្គូលដា ម៉ែរ ទៅចរចាសុំកូនក្មេងពីជំរំដាក់ជនជាតិជ្វីហ្វនៅ សាយព្រៀត កាលនោះមានឧបសគ្គធំៗពីរ ១) អាជ្ញាធរអង់គ្លេស ២)មនុស្សដែលទៅដល់មុន ចង់ចេញមកមុន

ហេតុផលះ ១)មនុស្សចាស់ទទួល ២)មិនទាន់ជិតដាមនឹងអ្វីទាំងអស់ មនុស្សស្អាត រៀនសូត្រ
និងអភិវឌ្ឍន៍លឿន ។ នឹងរំភើបចិត្តពេលឃើញយុវជន យុវនារីនៅប៉ាឡេស្ទីនជុតដៃ
ជុតជើងជួយសង្គ្រោះជនរងគ្រោះពីនាវា សេវាកម្មសង្គម និងចុះឈ្មោះបម្រើយោធា
ការងារផលប្រយោជន៍ជនជាតិជ្វីហ្វនៅទីនោះ

[4] Aden ជាទីក្រុងកំពង់ផែនៅសមុទ្រក្រហមក្នុងប្រទេសយេម៉ែន។
[5] Yemen

ទី២. ហ្គូលដា ម៉ែរ កាលជារដ្ឋមន្ត្រីក្រសួងការងារ "ប្រៀបធៀបស្ថានភាពកូនអ្នកក្រ និងអ្នកមាន

ទី៣. ហ្គូលដា ម៉ែរ កាលជានាយករដ្ឋមន្ត្រី "បង្កើតគណៈកម្មាធិការ..."

ទី៤. ជួបជនជាតិជ្វីហ្វ មកពីហូឡង់ម្នាក់ សួរថាហេតុអ្វីបានជាពូកែ និងសុទ្ធសឹងជាមនុស្ស ឆ្នើម និងគំរូក្នុងលោក។ ចម្លើយ "ការតស៊ូ និងឲ្យតម្លៃលើការសម្រេចការងារជាជាងប្រាក់ឈ្នួល កូនៗជ្វីហ្វត្រូវបាន បង្រៀនឲ្យចេះយល់ហេតុផល និងពិសេសទម្លាប់ស្រឡាញ់សៀវភៅ អានសៀវភៅ និងចូលចិត្តរៀន ដែល ជាប្រភពចំណេះដឹងតាំងពីនៅតូចៗ កាដូថ្ងៃខួបកំណើត និងទិវាពិសេសផ្សេងៗ ដែលពួកគេគិតថាអស្ចារ្យ គឺ សៀវភៅនេះឯង។ រស់នៅជាជីវិតគំរូផង ពួកគេក៏ត្រូវបានកើនរំលឹកជាញយដងថា ពួកគេជា ជនជាតិជ្វីហ្វ ដែលត្រូវធ្វើគ្រប់កិច្ចការអ្វីទាំងអស់ទ្វេ ឬត្រីដង ធៀបនឹងជាតិសាសន៍ផ្សេងៗ។ ជីវិតជនជាតិជ្វីហ្វជាជីវិតឆ្លើម និងលេចធ្លោ"។

ទាក់ទនឹងការឲ្យតម្លៃការអានសៀវភៅដូច្នេះហើយ បានកើតចេញជាពាក្យស្លោកមួយ "ការអានធ្វើឲ្យជាតិអ្នកជាជាតិដ៏អស្ចារ្យមួយ" ហើយដែលពាក្យស្លោកនេះមានបិទនៅគ្រប់បឋម សិក្សានៅសហរដ្ឋអាមេរិក។

តាមការសិក្សាអង្កេត គេរកឃើញថា "គិតជាមធ្យម ជនជាតិអុីស្រាអែល ជាជនជាតិដែលមានសៀវភៅថ្មីៗ ក្នុងបន្ទប់សិក្សាតាមផ្ទះរបស់ខ្លួនច្រើនជាងគេបំផុតលើលោក"។

ដោយឃើញសារៈសំខាន់នៃព័ត៌មាននេះហើយបានជាភាគច្រើន នៃអ្នកបោះពុម្ពផ្សាយជាសេដ្ឋី (សៀវភៅ កាសែត និងទស្សនាវដ្តី)ធំៗ លើលោក ពិសេសនៅអាមេរិក ជាជនជាតិជ្វីហ្វ។ ឧ. ម្ចាស់ ខែមប៊ូឃែរ ដែលី ជាជនជាតិជ្វីហ្វ នៅអាមេរិក។

ទី៥.

"We can forgive the Arabs for killing our children. We cannot forgive them for forcing us to kill their children. We will only have peace with the Arabs when they love their children more than they hate us."

ពួកយើងអាចអនុគ្រោះឲ្យពួកអារ៉ាប់ដែលពួកគេសម្រាប់កូនចៅយើង។ យើងមិនអាច អនុគ្រោះឲ្យពួកគេបានទេ ដែលពួកគេបង្ខំឲ្យពួកយើងសម្លាប់កូនចៅពួកគេនោះ។ ពួកយើងអាច មានសន្តិភាពជាមួយពួកអារ៉ាប់បាន លុះត្រាណាតែពួកគេស្រឡាញ់កូនចៅពួកគេច្រើនជាងស្អប់ពួកយើង"។